(Munafiq in Islam, Part I)

وعنهُ قال : قال رسولُ اللّهَّ صَلّى الله عَلَيْهِ وسَلَّم : « لَيْسَ صَلاةٌ أَثْقَلَ عَلَى المُنَافِقِينَ مِنْ صلاة الفَجْرِ وَالعِشاءِ وَلَوْ يَعْلَمُونَ ما فِيهما لأَتَوْهُما وَلَوْ حبْوًا » متفق عليه .

អំពី គាត់رضي الله عنه ថា: រ៉ស៊ូលុលឡោះ ﷺមានប្រសាសន៍ថា : " គ្មានសឡាត ណា ដែលធ្ងន់ធ្ងរលើពួកអ្នកមុណាហ្វិក(ពុតត្បុត)ជាងសឡាតអ៊ីសា និងស៊ូពោះ ឡើយ ហើយ ប្រសិនបើពួកគេដឹងអំពីផលបុណ្យនៃសឡាតទាំងពីរនេះ ពួកគេ ពិតជានឹងទៅសឡាតវា ទាំងពីរ ទោះបីជាត្រូវវារក៏ដោយ"

(រាយការណ៍ដោយអាល់ពូខរី និងមូស្លីម)

(Riyad as-Salihin 1073)

عن بُرَيْدَةَ رَضِي اللهَّ عنهُ قَالَ : قَالَ رَسُولُ اللهَّ صَلّى اللهُ عَلَيْهِ وسَلَّم : « لا تَقُولُوا لِلْمُنَافِقِ سَيِّدٌ ، فَإِنَّهُ إِنْ يكُ سَيِّداً ، فَقَدْ أَسْخَطْتُمْ رَبَّكُمْ عزَّ وَجَلَّ » رواه أبو داود بإِسنادٍ صحيحٍ .

អំពី ពូរ៉យហ្ទះرضي الله عنه ថា : រ៉ស៊ូលុលឡោះ ﷺបានមានប្រសាសន៍ថា : " ចូរ ពួកអ្នកកុំ និយាយទៅចំពោះពួកពុតត្បុតថាចៅហ្វាយព្រោះបើពួកអ្នកលើកគាត់ជា ចៅហ្វាយពួកអ្នក ប្រាកដជាបានធ្វើអោយម្ចាស់របស់ពួកអ្នកខឹងសម្បារ"

Caption

(រាយការណ៍ដោយអាពូដាវូទ ដោយមានបង្អែកត្រឹមត្រូវ)

(Riyad as-Salihin 1725)

وعن أبي هُريرةَ رضي اللهَّ عَنْهُ قال : قال رسُولُ اللهَّ صَلّى اللهُ عَلَيْهِ وسَلَّم : « تَجدُونَ النَّاسَ معادِنَ : خِيارُهُم في الجاهِلِيَّةِ خيارُهُم في الإِسْلامِ إِذَا فقُهُوا ، وتجدُونَ خِيارَ النَّاسِ في هذا الشَّأنِ أشدَّهُمْ لهُ كَراهِيةً ، وتَجدُونَ شَرَّ النَّاسِ ذا الوجْهيْنِ ، الذي يأتي هؤلاءِ بِوجْهٍ وَهؤلاءِ بِوَجْهٍ » متفقٌ عليه .

អំពី អាពូហ៊ូរ៉យរ៉ោះرضي الله عنه ថា : រ៉ស៊ូលុលឡោះ ﷺបានមានប្រសាសន៍ថា : "មនុស្សគឺដូចជារ៉ែ(លក្ខណៈដើមរបស់គាត់)។ អ្នកដែលល្អជាងគេនៃពួកគេ នៅ ជំនាន់ហ្ជាហ៊ីលីយ៉ះ(ជំនាន់មុនអ៊ីស្លាម) គឺជាមនុស្សល្អជាងគេនៅជំនាន់អ៊ីស្លាម ប្រសិនបើគាត់

យល់ដឹងពីសាសនា។ មនុស្សដែលល្អជាងគេក្នុងការគ្រប់គ្រងគឺ មនុស្សដែលមិនពេញចិត្តចំពោះវា។ មនុស្សដែលអាក្រក់បំផុតគឺមនុស្សមុខពីរ គឺអ្នកដែលទៅជួបពួកនេះនឹងមុខមួយ ហើយជួបពួកអ្នកនោះនឹងមុខមួយទៀត"
(រាយការណ៍ដោយអាល់ពូខរី និងមូស្លីម)
(Riyad as-Salihin 1540)

~munāfiq មកពីពាក្យ nifāq (نِفَاق) ដែលមានន័យថា
ការធ្វើពុត ការក្លែងបន្លំ

~munāfiq មានពហុវចនៈជា ‘munafiqeen’ or ‘munafiqun’

~munāfiq ត្រូវបានគេដាក់ជាឈ្មោះជាស៊ូរោះនៅក្នុងគម្ពីរ al-Quran ផងដែរថា៖ Surah Al-Munafiquun

~munāfiq គឺជាជនអ៊ីស្លាមក្លែងក្លាយ ឬអ្នកមានជំនឿក្លែងក្លាយ

~munāfiq គឺជាមនុស្សអាក្រក់បំផុត ដោយសារពួកគេជាមនុស្សមុខ 2 នៅពេលខ្លះទៅជួបពួកនេះនឹងមុខមួយហើយជួបពួកអ្នកនោះនឹងមុខមួយទៀត
(Riyad as-Salihin 1540)

~munāfiq គឺជាជនដែលស្ថិតនៅទីសាធារណៈ ឬនៅក្នុង សហគមន៍ណាមួយបង្ហាញថាខ្លួនពួកគេជាអ្នកអ៊ីស្លាម ក៏ប៉ុន្តែ បដិសេធនឹងអ៊ីស្លាម ឬបណ្តុះគំនិត និងផ្សព្វផ្សាយប្រឆាំងនឹង អ៊ីស្លាមទាំងនៅក្នុងចិត្តរបស់ពួកគេ និងនៅក្នុងចំណោម សត្រូវរបស់អ៊ីស្លាមផងដែរ

~munāfiq គឺជាជនដែលខាងក្រៅធ្វើពុតជាមានជំនឿនឹង អល់ឡោះជាម្ចាស់ ម៉ាឡាអ៊ីកាត់ គម្ពីរៗ អ្នកនាំសារ និងថ្ងៃបរលោក ខណៈដែលខាងក្នុងរបស់ពួកគេជឿផ្ទុយអំពីវា ឬខ្លះៗ ហើយគេអាចចាត់ទុកវាថាជា munāfiq ធំ (major hypocrisy)

~munāfiq គឺជាជនដែលយក kafir ធ្វើជាមិត្តជិតស្និទ្ធហើយពួកគេមិនយកពួកអ្នកមានជំនឿនោះទេ

(al-Quran 4:138-139)

~munāfiq ជាជនបរិភោគអាហារច្រើន គឺបរិភោគនឹង 7 ពោះ

(Sahih al-Bukhari 5394)

~munāfiq ជាជនស្អប់ពួក Ansar

(Riyad as-Salihin 380)

~munāfiq ជាជនចំអកលេងសើច

(al-Quran 2:14)

~munāfiq ជាជនបដិសេធជំនឿបន្ទាប់ពីទទួលយកអីស្លាម

~munāfiq ជាជនដែលមិនប្រាថ្នាសេចក្តីប្រោសប្រណីអំពីអល់ឡោះជាម្ចាស់សូម្បីតែពួកគេបានរស់នៅក្នុងចំណោមអ្នកអីស្លាមយ៉ាងណាក៏ដោយ ។

Caption

~munāfiq ជាពួកដែលបង្ខូចកេរ្តិ៍ឈ្មោះសប្បុរសជនដូចជា ពួកមានជំនឿ និងពួកដែលគ្មានអ្វីបរិច្ចាគក្រៅពីតាមលទ្ធភាព របស់ពួកគេ

(Sahih al-Bukhari 4668)
(al-Quran 9:79)

~munāfiq ត្រូវបានគម្ពីរ al-Quran ពណ៌នាថាជាក្រុមមួយដែលថាខ្លួនជាមូស្លីមប៉ុន្តែក្នុងចិត្តរបស់ពួកគេពោរពេញទៅដោយអជំនឿ និងមានសកម្មភាពប៉ះពាល់អាក្រក់ដល់សហគមន៍អីស្លាម

~munāfiq ត្រូវបានគម្ពីរ al-Quran ពណ៌នាថាជាក្រុម
ដែលផ្ដល់ភាពគ្រោះថ្នាក់ដល់អីស្លាមច្រើនជាងសត្រូវរបស់ អីស្លាមដែលធ្លាប់ធ្វើសង្គ្រាមជាមួយថែមទៀតផង

~munāfiq ត្រូវបានអល់ឡោះជាម្ចាស់ស្អប់ដោយសារពួក គេស្អប់ពួក Ansar
(Riyad as-Salihin 380)

~munāfiq ត្រូវបានអល់ឡោះជាម្ចាស់បោះបង់ពួកគេទុកឲ្យស្ថិតក្នុងភាពគ្មានជំនឿ
(al-Quran 4:88)

~munāfiq ត្រូវបានគេអនុញ្ញាតិឲ្យសម្លាប់នៅទីណាដែល ជួបពួកគេនៅពេលណាដែលពួកគេងាកចេញអំពីអ្វីដែលគេបានអំពាវនាវ ឬណែនាំ ។
(al-Quran 4:89)

~munāfiq មិនត្រូវបានគេយកធ្វើជាសម្ព័ន្ធមិត្តនោះទេលើកលែងតែពួកគេភៀសខ្លួនក្នុងមាគ៌ារបស់អល់ឡោះ។

Caption

(al-Quran 4:89)

~munāfiq ដែលពិតប្រាកដមានសញ្ញាសំគាល់ចំនួន 3 ឬ4៖

1.នៅពេលនិយាយគាត់កុហក

2.នៅពេលសន្យាមិនបំពេញតាមការសន្យា

3.នៅពេលគេទុកចិត្តគាត់ គាត់បោកប្រាស់

4.នៅពេលឈ្លោះប្រកែកតវ៉ាគាត់ងាកចេញអំពីការពិត ឬមួយប្រើពាក្យសម្ដីអាសគ្រាម

~munāfiq បើមានសញ្ញាសំគាល់ទាំង 4 នោះហើយទោះបីជននោះបានធ្វើការបួស សឡាត ឬត្រូវបានគេគិតថាជាអ្នកអីស្លាមយ៉ាងណាក៏ដោយ គឺពួកគេស្ថិតនៅក្នុងលក្ខណះជាជន munāfiq ដដែលលុះត្រាតែពួកគេបោះបង់អត្តចរិក ឬលក្ខណះទាំងនោះចេញ ។

(Riyad as-Salihin 199)
(Riyad as-Salihin 1543)
(Sunan Abi Dawud 4688)
(Sahih Muslim 58)

~mu'min បើមានសញ្ញាសំគាល់ទាំង 4 នេះពួកគេគ្រាន់តែស្ថិតនៅក្នុងចំណោមភាពជាលក្ខណះពុតត្បុតតូច (minor hypocrisy) ដោយសារពួកគេមានសញ្ញាសំគាល់ ដូចខ្លះៗតែមិនដូចទាំងស្រុង និងសារភាពកំហុសរបស់ពួកគេ

~munāfiq មានចរិកលក្ខណះមិនដូចមនុស្សទមិឡនោះទេ ដោយសារពួកគេប្រតិបត្តិដូចទៅនឹងអីស្លាមផងដែរ

~munāfiq មានភាពគ្រោះថ្នាក់ជាងពួក kafir ដោយសារ ពួកគេបានជ្រៀតចូល ឬស្ថិតក្នុងសហគមន៍អីស្លាម និងសំដែងធ្វើជាពួកអ្នកមានជំនឿទាំងការអនុវត្ត និងជីវិតរស់នៅរបស់ពួកគេ ។

Caption

~munāfiq មានលក្ខណះរបស់ពួកគេចូលចិត្តមុខ 2 នៅពេលពួកគេជួបក្រុមមួយនូវមុខនេះ និងក្រុមមួយផ្សេងនូវមុខនោះ

(Riyad as-Salihin 1540)

~munāfiq ជនមួយត្រូវបានគេអាចចាត់ទុកថាដូច្នោះនៅពេលណាពួកគេស្លាប់ដោយមិនបានប្រយុទ្ធ ឬមិនប្រកាសថាការប្រយុទ្ធរបស់ពួកគេជាកាតព្វកិច្ចមួយសំរាប់ខ្លួនរបស់ពួកគេ ។

(Sunan Abi Dawud 2502)

~munāfiq ចំពោះសឡាត ‘Isha និង Fajr ជាសឡាត ដែលធ្ងន់ធ្ងរសំរាប់ពួកគេ
(Riyad as-Salihin 1073)

~munāfiq ចំពោះសឡាត ‘Isha និង Fajr ជាពេល
សឡាតដែលបែងចែករវាងពួកគេនឹងអ្នកអីស្លាម គឺពួកគេមិនអាចធ្វើបាននោះទេ
(Muwatta Malik: Book 8, Hadith 292)

~munāfiq នឹងវារទៅរកសឡាត ‘Isha និង Fajr បើពួក គេដឹងអំពីផលបុណ្យរបស់វា
ទាំងពីរ
(Riyad as-Salihin 1073)

~munāfiq ចំពោះសឡាតស៊ុំណ្ណះពួកគេអង្គុយរង់ចាំព្រះអាទិត្យរហូតដល់វាចេញជា
ពណ៌លឿងនៅឯស្នែង (ក្បាល) ឬរវាងស្នែងនៃ Satan ពួកគេងើបសឡាតចំនួន 4
rak'ahs ភ្លាមៗ ឬសូត្រយ៉ាងញាប់មាត់ដោយពួកគេមិនសូត្រ ឬរំលឹកចំពោះអល់ឡោះជា
ម្ចាស់នោះទេលើក
លែងតែបន្តិចបន្តួច ។
(Sunan Abi Dawud 413)
(Muwatta Malik: Book 15, Hadith 518)

~munāfiq ត្រូវបានអីស្លាមហាមឃាត់មិនឲ្យលើកតម្កើង ឬតែងតាំងពួកគេ ឬហៅពួកគេ
ថាជាមេដឹកនាំនោះទេ
(Riyad as-Salihin 1725)

~munāfiq មានបំណងប្រាថ្នាចង់ឱ្យអ្នកអីស្លាមប្រឆាំងដូច អ្វីដែលពួកគេបានប្រឆាំងដែរ
ពេលនោះនឹងក្លាយដូចជាពួកគេជាមិនខាន
(al-Quran 4:89)

~munāfiq ស្អប់ ‘Ali bin Abi Talib

(Jami` at-Tirmidhi 3736)

~munāfiq សញ្ញារបស់ពួកគេ គឺស្អប់ ’Ali bin Abi Talib

(Sahih Muslim 74 a)

~munāfiq នៅសម័យរ៉សូលុលឡោះ ﷺ ធ្វើអំពើអាក្រក់ដោយលាក់កំបាំង

(Sahih al-Bukhari 7113)

~munāfiq នៅសម័យបច្ចុប្បន្នពិតជាគ្រោះថ្នាក់ជាងសម័យរ៉សូលុលឡោះ ﷺ ដោយសារពួកគេធ្វើអំពើអាក្រក់ដោយបើកចំហរ

(Sahih al-Bukhari 7113)

~munāfiq នៅពេលស្ថិតក្នុងសមរភូមិតែងតែ៖

Caption

1.មិនខ្វល់ខ្វាយអ្វីក្រៅតែពីខ្លួនឯង

2.ជាមនុស្សកំសាកបំផុត

3.ភ័យខ្លាចបំផុត

4.រត់ចេញពីការពិត ឬការប្រយុទ្ធ

(Jami` at-Tirmidhi 3008)

~munāfiq នឹងត្រូវខ្យល់ដ៏ខ្លាំងមួយសំលាប់ពួកគេ

(Sahih Muslim 2782)

~munāfiq នឹងស្ថិតនៅបាតនរក

(al-Quran 4:145)

~munāfiq នឹងចូលនរកថ្នាក់ជ្រៅៗជាងពួក kafir

~munāfiq នឹងបោះបង់ចោលការប្រយុទ្ធ ឬរត់ចោលសមរភូមិប្រយុទ្ធ
(Sunan Abi Dawud 2502)

~munāfiq នឹងគ្មានជនណាជួយពួកគេនោះឡើយ
(al-Quran 4:145)

~munāfiq នឹងរត់គេចចេញអំពីសមរភូមិនៅពេលដែល ពួកគេដឹងថានឹងបរាជ័យ ឬមានកម្លាំងខ្សោយជាងសត្រូវដូចជា Battle of Uhud
(Sahih al-Bukhari 1884)

~munāfiq នឹងចាកចេញពី Masjid នៅពេលគេបាន adhan រួច គឺចាកចេញដោយគ្មានមូលហេតុចាំបាច់ពិតប្រាកដ ហើយក៏គ្មានគោលបំណងត្រឡប់មកវិញឡើយ
[Mishkat al-Masabih 1076]
[Ibn Majah Grade: Dai’f]

~munāfiq នឹងនិយាយជាមួយបណ្តាអ្នកមានជំនឿថាពួកគេជឿហើយ តែនៅពេលដែល

Caption

ពួកគេបានវិលត្រឡប់ទៅជួបនឹងមេដឹកនាំរបស់ពួកគេវិញពួកគេបាននិយាយថាពិតប្រាកដណាស់ពួកយើងនៅជាមួយពួកអ្នក(ប្រកាន់ជំនឿដូចពួកអ្នកដែរ) តាមការពិតពួក យើងគ្រាន់តែចំអកលេងសើចប៉ុណ្ណោះ។
(al-Quran 2:14)

~munāfiq ឬមេដឹកនាំពួកគេនៅសម័យរ៉ស៊ូលុលឡោះ ﷺ ត្រូវបានស្លាប់នៅទីក្រុង Madina បន្ទាប់ពីណាប៊ី បានមានប្រសាសន៍ថាដោយសារខ្យល់ដ៏កាចសាហាវ មួយនេះបានធ្វើឲ្យជនពុតត្បុតស្លាប់ ។
(Sahih Muslim 2782)

~munāfiq នៅពេលពួកគេទៅរកគ្នារបស់ពួកគេវិញ ពួកគេនឹងបោះបង់ចោលក្រុមមួយទៀត ។

~munāfiq នៅពេលពួកគេស្លាប់ទៅនឹងត្រូវបាន Malaikah មកស៊ើបអង្កេត និងសួរពួកគេថា៖

»តើអ្នកគោរពសក្ការៈអ្នកណា? គាត់ឆ្លើយថា៖ ខ្ញុំមិនដឹងទេ ។
»គាត់នឹងមានគេប្រាប់ថា៖ អ្នកមិនដឹង ហើយក៏មិនធ្វើតាមអ្នកមានជំនឿទៀត ។
»គាត់នឹងត្រូវបានគេសួរទៀតថា៖ តើអ្នកយល់យ៉ាងណា ដែរចំពោះបុរសនេះ? គាត់ឆ្លើយថា៖ ខ្ញុំប្រកាន់គំនិតដូចអ្នក ដទៃប្រកាន់ដែរ ។
»បន្ទាប់មកគាត់នឹងត្រូវគេវាយរវាងត្រចៀករបស់គាត់នឹងញញួរដែក ហើយគាត់នឹងស្រែកយ៉ាងខ្លាំងដែលធ្វើឲ្យអ្វីៗនៅជុំវិញគាត់លឺទាំងអស់លើកលែងតែមនុស្ស និង jinn
(Sunan Abi Dawud 4752)

~munāfiq មានទំនាក់ទំនងនឹង 2 ផ្នែកគឺ៖

Caption

1.Al-Badha (ٱلْبَذَاءُ) ជាការប្រើពាក្យមិនសមរម្យ

2.Al-Bayan (ٱلْبَيَانُ) ជាការនិយាយដោយស្ទាត់ជំនាញ

(Jami` at-Tirmidhi 2027)

~Allāh ខឹងចំពោះជនណាដែលលើកតម្កើងពួក munāfiq ឬតែងតាំងពួកគេ ឬហៅពួកគេថាជាមេដឹកនាំ

(Riyad as-Salihin 1725)

~Allāh នឹងដាក់ទោស munāfiq ធ្ងន់ធ្ងរដោយសារការពុតត្បុត និងអជំនឿរបស់ពួកគេ

~Allāh ដឹងយ៉ាងច្បាស់ចំពោះពួកពុតត្បុត។
(al-Qur’an 29:11)

~Allāh បានធ្វើឲ្យពួក munāfiq វង្វេង
(al-Quran 4:88)

~Allāh នឹងចំអកដល់ពួក munāfiq និងដាក់ទារុណកម្មពួកគេដោយសារតែពួកគេបានចំអកដល់អ្នកមានជំនឿ និងអ្នកដែលគ្មានអ្វីបរិច្ចាគក្រៅពីតាមលទ្ធភាពរបស់ពួកគេ ។
(al-Quran 9:79)

~ស្រ្តីដែលព្យាយាមសុំ Khul' និងសុំលែងលះ គឺដូចជាស្រ្តី munāfiq
(Sunan an-Nasa'i 3461)

~រ៉សូលុលឡោះ ﷺ ធ្លាប់បាន Dua Qunut បណ្ដាសា ទៅលើពួក munāfiq
(Sunan an-Nasa'i 1078)

~Sahabat បានចាត់ទុកថាការនិយាយកុហកអំពីអ្វីមួយចំពោះមុខអ្នកមានអំណាចថាជាទង្វើ
Caption
ពុតត្បុត់ ។
(Riyad as-Salihin 1541)

~munāfiq បានចំអកទៅលើសព Sahabat ម្នាក់ឈ្មោះ Sa'd bin Mu'adh ដោយសារគាត់បានធ្វើការកាត់សេចក្ដីអំពី Banu Quraizah ដែលធ្វើឲ្យពួក munāfiq មិនសប្បាយចិត្ត ហើយនៅពេលដែល Sa'd bin Mu'adh បានស្លាប់ និងសពបានហែរចំពោះមុខពួកគេ ដោយចំអកថាសពរបស់គាត់ស្រាលម្ល៉េះ ។ រ៉សូលុលឡោះ ﷺ បានឆ្លើយតបថាម៉ាឡាអ៊ីកាត់បានសែងសពរបស់គាត់
(Jami` at-Tirmidhi 3849)

~munāfiq បានចំអកទៅលើពួកដែលគ្មានអ្វីបរិច្ចាគក្រៅពីតាមលទ្ធភាពរបស់ពួកគេថា អល់ឡោះមិនត្រូវការរបស់បរិច្ចាគបន្តិចបន្តួចទាំងនេះទេ ហើយបុរសនេះមិនបរិច្ចាគ នោះទេគ្រាន់តែចង់ បង្ហាញអ្នកដ៏ទៃប៉ុណ្ណោះ ។
(Sahih al-Bukhari 4668)

~munāfiq និង kafir ទាំងឡាយត្រូវបានអល់ឡោះដកចេញពីទីក្រុង Medina តាមរយះការរញ្ជួយដីចំនួន 3 ដង ។
(Sahih al-Bukhari 1881)

~mu’min មិនត្រូវបែងចែកជា 2 ក្រុម ឬបក្សចំពោះ
ការកាត់ក្ដី munāfiq
(al-Quran 4:88)

~mu’min មិនត្រូវចង្អុលបង្ហាញផ្លូវចំពោះពួក munāfiq នោះទេដោយសារពួកគេត្រូវបានអល់ឡោះធ្វើឲ្យវង្វេង

Caption

~ជនមូស្លីមមិនត្រូវយក munāfiq ធ្វើជាអ្នកគាំពារ និងជាអ្នកជំនួយនោះទេ ។
(al-Quran 4:89)

•ការប្រៀបធៀបជន munāfiq

1.munāfiq ត្រូវគេប្រៀបប្រដូចនឹងផ្លែរ៉ូយហាណះ និងផ្លែហាន់ហ្ស៊ំឡះ

អំពី អាពូ មូសា អាល់អាស្សអារី رضي الله عنه ថា : រ៉ស៊ូលុលឡោះ ﷺ បានមាន ប្រសាសន៍ថា : " ការប្រៀបធៀបអ្នកមានជំនឿដែលសូត្រគួរអាន គឺដូចជាផ្លែ អ៊ុតរ៉ុជ្ជះដែលមានក្លិន

និងរសជាតិឆ្ងាញ់ ហើយការប្រៀបធៀបអ្នកមានជំនឿ ដែលមិនសូត្រគួរអានគឺដូចជាផ្លែល្មើវាគ្មានក្លិនទេប៉ុន្តែរសជាតិរបស់វាផ្អែម។ ចំណែកការប្រៀបធៀបអ្នកមូណាហ្វិក(ពុតត្បុត)ដែលសូត្រគួរអានគឺដូចជាផ្លែរ៉ៃយហាណះក្លិនរបស់វាល្អប៉ុន្តែរសជាតិរបស់វាល្វីងហើយការប្រៀបធៀបអ្នកពុតត្បុត ដែលមិនសូត្រគួរអានគឺដូចជាផ្លែហាន់ហ្ស៊ំឡះគ្មានក្លិនហើយរសជាតិរបស់ល្វីង"

(រាយការណ៍ដោយអាល់ពូខរី និងមូស្លីម)

(Riyad as-Salihin 995)
(Jami` at-Tirmidhi 2865)
(Sahih al-Bukhari 5059)

2.munāfiq ត្រូវគេប្រៀបប្រដូចនឹងដើមស្រល់ (cedar tree) ឬដើមស្រស់ (cypress tree) ដែលដុះត្រង់ ដែលគ្មានបំលាស់ទី និងមិនមានអ្វីអាចប៉ះពាល់ដល់វារហូតដល់គេដកវាចេញ ។

(Sahih al-Bukhari 5643)
(Sahih Muslim 2810 b)
(Sahih Muslim 2809 a)

Caption

3.munāfiq ត្រូវគេប្រៀបប្រដូចនឹងសត្វចៀមមួយក្បាល ដែលដើរដោយគ្មានគោលដៅរវាងហ្វូង 2 ដោយវាទៅហ្វូង មួយនៅពេលនេះ និងចូលហ្វូងមួយទៀតនៅពេលផ្សេង ។ ជួនកាលវាស្វែងរកផ្លូវចូលហ្វូងណាមួយ ហើយបន្ទាប់មកវាចូលហ្វូងផ្សេងមួយទៀត ។

(Sahih Muslim 2784 a)
(Sahih Muslim 2784 b)

~ឬ ដូចជាសត្វចៀមមួយក្បាលដែលវាស្ទាក់ស្ទើររវាងហ្វូង 2
ជួនកាលវាដើរតាមហ្វូងមួយ និងជួនកាលទៀតដើរតាមហ្វូងផ្សេងទៀតដោយមិនដឹងថាត្រូវដើរតាមហ្វូងមួយណា ។

(Sunan an-Nasa'i 5037)

4.munāfiq ត្រូវគេប្រៀបប្រដូចនឹងមនុស្សមុខ 2 មនុស្សដែលអាក្រក់បំផុតក្នុងចំណោមមនុស្សលោក៖

អំពី អាពូហ៊ូរ៉យរ៉ោះ رضي الله عنهថា : រ៉សូលុលឡោះ ﷺបានមានប្រសាសន៍ថា : "មនុស្សគឺដូចជារ៉ែ(លក្ខណៈដើមរបស់គាត់)។ អ្នកដែលល្អជាងគេនៃពួកគេ នៅ ជំនាន់ហ្ជាហ៊ីលីយ៉ះ(ជំនាន់មុនអ៊ីស្លាម) គឺជាមនុស្សល្អជាងគេនៅជំនាន់អ៊ីស្លាម ប្រសិនបើគាត់យល់ដឹងពីសាសនា។ មនុស្សដែលល្អជាងគេក្នុងការគ្រប់គ្រងគឺ មនុស្សដែលមិនពេញចិត្តចំពោះវា។ មនុស្សដែលអាក្រក់បំផុតគឺមនុស្សមុខពីរ គឺអ្នកដែលទៅជួបពួកនេះនឹងមុខមួយ ហើយជួបពួកអ្នកនោះនឹងមុខមួយទៀត"
(រាយការណ៍ដោយអាល់ពូខរី និងមូស្លីម)
(Riyad as-Salihin 1540)

5.munāfiq ត្រូវគេប្រៀបប្រដូចនឹងដុំឈើដែលគេផ្អែកចោលប៉ុណ្ណោះ ឬដោយសារពួកគេមិនយល់អ្វីឡើយ
(al-Quran 63:4)

•munāfiq mu’min និង kafir

»munāfiq និង mu’min អាចនឹងមានលក្ខណៈគោរពសក្ការៈដូចគ្នាតែក៏មានលក្ខណៈខុសគ្នាដូចជា៖

1.munāfiq សឡាត ឬងើបឈរសឡាតដោយខ្ជិលច្រអូស

2.munāfiq សឡាតយ៉ាងលឿន

3.munāfiq សឡាតនៅពេលថ្ងៃរះ ឬពេលវេលា Satan លិចឡើង

4.munāfiq មិនចូលចិត្តសឡាតជាក្រុមនៅសឡាត Fajr និង ‘Isha

5.munāfiq សឡាតដោយសូត្រយ៉ាងញាប់មាត់

6.munāfiq សឡាតចង់ឲ្យអ្នកដទៃមើលឃើញប៉ុណ្ណោះ

7.munāfiq Zikr ទៅចំពោះអល់ឡោះជាម្ចាស់បន្តិចបន្តួច ឬពួកគេមិនរំលឹកទៅចំពោះព្រះនោះទេ

8.munāfiq ធ្វើការគោរពសក្ការះអ្វីមួយចង់បានលទ្ធផលភ្លាមៗ

9.munāfiq ធ្វើប្រតិបត្តិនូវអ្វីមួយដែលការងារនោះផ្តល់ផលបុណ្យ ឬផលប្រយោជន៍ច្រើនដល់ពួកគេ

»munāfiq មានភាពខុសគ្នាយ៉ាងខ្លាំងរវាងពួកគេនិង kafir ដូចជា៖

1.munāfiq បានដឹង យល់ ចេះអំពីគម្ពីរ

2.munāfiq អាចប្រតិបត្តិតាម ឬបត់បែនបានតាមបញ្ជារបស់ព្រះ

3.munāfiq អាចសូត្រ ឬបរិយាយនូវអាយ៉ាត់ៗ តែចិត្ត របស់ពួកគេមិនតាមអ្វីដែលខ្លួនធ្លាប់និយាយ

Caption

4.munāfiq អាចលាក់បាំងភាពអជំនឿ ការប្រឆាំង ការមិនពេញចិត្ត អំពើបាបរបស់ខ្លួនបាន (វាជាសញ្ញាធំៗរបស់ពួកគេ)

•munāfiq នៅក្នុងស៊ូរោះ Surah Munafiqun

»មេរៀនដែលទទួលបានអំពីស៊ូរោះនេះ munāfiq ត្រូវបានពណ៌នាថា៖

1.munāfiq ជាជនដែលទទួលស្គាល់អ្នកនាំសារជាអ្នកនាំសាររបស់ព្រះ

2.munāfiq យកការស្បថជាខែល

3.munāfiq រារាំងអ្នកដទៃអំពីមាគ៌ារបស់អល់ឡោះ

4.munāfiq ធ្លាប់បានប្រព្រឹត្តអំពើអាក្រក់

5.munāfiq ពួកគេជាអ្នកមានជំនឿតែបានប្រឆាំងវិញ

6.munāfiq ត្រូវបានអល់ឡោះបោះត្រាភ្ជិតលើដួងចិត្តរបស់ពួកគេដែលធ្វើឲ្យពួកគេមិនអាចស្វែងយល់អ្វីៗបានឡើយ

7.munāfiq មានរូបរាងកាយ និងសម្ដីរបស់ពួកគេនឹងធ្វើឲ្យមនុស្សពេញចិត្ត និងស្ដាប់ចំពោះពួកគេ

8.munāfiq ពួកគេដូចទៅនឹងដុំឈើដែលគេផ្អែកចោល ប៉ុណ្ណោះ

9.munāfiq គិតថាសំលេងស្រែកទាំងឡាយសំដៅ ទៅលើពួកគេ

10.munāfiq គឺជាសត្រូវនឹងអីស្លាម ហើយចូរប្រុងប្រយ័ត្នចំពោះពួកគេ

11.munāfiq ត្រូវបានអល់ឡោះដាក់បណ្ដាសារទៅលើ ពួកគេ

12.munāfiq នឹងមិនអាចគេចចេញអំពីការពិតបាននោះទេ

Caption

13.munāfiq នឹងមិនទទួលការសុំខមាលឲ្យសំរាប់ខ្លួន ពួកគេនោះទេដោយពួកគេក្រវីក្បាល

14.munāfiq នឹងងាកចេញអំពីអីស្លាមដោយក្រអឺតក្រទម

15.munāfiq អល់ឡោះជាម្ចាស់នឹងមិនអភ័យទោសដល់ពួកគេនោះទេ

16.munāfiq គឺជាក្រុម fasiq (ក្រុមដែលល្មើសនឹង បទបញ្ជា)

17.munāfiq គឺជាក្រុមមិនស្វែងយល់ និងមិនដឹងអ្វីឡើយ

18.munāfiq នឹងមិនចំណាយទ្រព្យសម្បត្តិរបស់ពួកគេ ទៅលើអ្នកដែលនៅជាមួយអ្នកនាំសារព្រះ

19.munāfiq នឹងដេញអីស្លាមចេញអំពីភូមិស្រុកបើពួកគេខ្លាំងជាង